💡 *Tips of the Week*



# (Visiting the Sick in Islam)

(Visiting the Sick in Islam)

អំពី អាល់ហ្បារ៉ក ពិន អាហ្សិប رضي الله عنهما ថា : រ៉ស៊ូលុលឡោះ ﷺបាន ប្រើពួកយើងអោយសួរសុខទុក្ខអ្នកជម្ងឺ ដង្ហែសព ឆ្លើយតប ពេលគេកណ្តាស អនុវត្តិតាមសម្បថ ជួយអ្នកដែលត្រូវគេបំពាន ឆ្លើយតបចំពោះការអញ្ជើញ និងអោយសាឡាម(គារវកិច្ច)គ្នា។ (រាយការណ៍ដោយអាល់ពូខរី និងមូស្លីម)

(Riyad as-Salihin 894)

~Ziyara Al-Marid ឬ Iyaadah (عيادة)

មានន័យថាការទៅសួរសុខទុក្ខអ្នកជម្ងឺ

~Iyaadah គឺជា Sunnah មួយ

~Iyaadah គឺជា Nafal នៅពេលទៅសួរសុខទុក្ខច្រើនដង

~Iyaadah គឺជា Sunnah ផងដែរសំរាប់ការសួរសុខទុក្ខ អ្នកមិនមែនអីស្លាម

~Iyaadah ត្រូវបានរ៉ស៊ូលុលឡោះ ﷺបញ្ជាឲ្យប្រតិបត្តិ
(Riyad as-Salihin 894)

~Iyaadah គឺជាសិទ្ធិមួយរបស់អ្នកអីស្លាមទៅលើអ្នកអីស្លាម
(Riyad as-Salihin 895)

~Iyaadah ត្រូវប្រើពាក្យសម្ដីណាដែលល្អៗ
(Riyad as-Salihin 920)

~Iyaadah ត្រូវបានអនុញ្ញាតិទៅលើអ្នកជម្ងឺមិនមែនអីស្លាមផងដែរ
(Riyad as-Salihin 900)

~Iyaadah ស៊ុណ្ណះទៅសួរគ្រួសារអ្នកជម្ងឺអំពី ស្ថានភាពរបស់អ្នកជម្ងឺ
(Riyad as-Salihin 910)

~Iyaadah ស៊ុណ្ណះឲ្យផ្ដាំផ្ញើគ្រួសារអ្នកជម្ងឺ និងអ្នកបំរើឲ្យប្រព្រឹត្តល្អចំពោះពួកគេ
(Riyad as-Salihin 913)

~Iyaadah គឺដូចជាស្ថិតនៅក្នុង خرفة الجنة
(សួនច្បារឋានសួគ៌) សំរាប់ការសួរសុខទុក្ខអ្នកអីស្លាមដែលជាបងប្អូន
(Riyad as-Salihin 898)

~Iyaadah គឺមានម៉ាឡាអ៊ីកាត់ចំនួន ៧០ពាន់ នាក់នឹងសុំអភ័យទោសអោយគាត់ (សំរាប់អ្នកអីស្លាមសួរសុខទុក្ខអ្នកអីស្លាម)

អំពីអាលី رضي الله عنه ថា : ខ្ញុំបានលឺរ៉ស៊ូលុលឡោះមានប្រសាសន៍ថា " រាល់ អ្នកអ៊ីស្លាម ដែលសួរសុខទុក្ខអ្នកអ៊ីស្លាមនៅពេលព្រឹក ម៉ាឡាអ៉ីកាត់ចំនួន ៧០ពាន់ នាក់នឹងសុំ អភ័យទោសអោយគាត់រហូតដល់ពេលល្ងាច។ ប្រសិនបើគាត់ សួរសុខ ទុក្ខបងប្អូនរបស់ គាត់នៅពេលល្ងាច ម៉ាឡាអ៉ីកាត់ចំនួន៧០ពាន់នឹងសុំអភ័យ ទោសអោយគាត់រហូតដល់ ពេលព្រឹក។ មិនតែប៉ុណ្ណោះគាត់នឹងទទួលបានផ្លែល្មើ ដែលបេះទុកសំរាប់គាត់នៅក្នុង ឋានសួគ៌" (រាយការណ៍ដោយអាត់តៀរមីត្ស៊ី ហើយគាត់និយាយថា: ហាទីស្ហនេះល្អ)
(Riyad as-Salihin 899)

~Iyaadah នឹងមានផ្លែល្មើសំរាប់គាត់នៅក្នុងឋានសួគ៌

~Iyaadah អាចទៅម្នាក់ឯង ឬជាក្រុម

~Iyaadah គួរទៅដោយមានទឹក Wudu’

~Iyaadah មិនតំរូវពេលវេលា ។ ស្ថិតក្នុងពេលណាមួយ ដែលគេបានផ្តល់ដំណឹងពី អ្នកណាម្នាក់ឈឺយើងអាចទៅសួរសុខទុក្ខភ្លាមៗក៏បាន

Caption

~Iyaadah អនុញ្ញាតិឲ្យយំបង្ហាញពីទុក្ខព្រួយ ព្រោះវាគឺជាក្តីស្រលាញ់ ដែលអល់ឡោះ បានបង្កើតវានៅក្នុងចិត្តខ្ញុំទាំងឡាយរបស់ទ្រង់ ហើយពិតណាស់ អល់ឡោះស្រលាញ់ ខ្ញុំ របស់ទ្រង់ណាដែលមានចិត្តអាណិតស្រលាញ់
(Riyad as-Salihin 925)

~អ្នកជម្ងឺត្រូវបានគេអនុញ្ញាតិឲ្យនិយាយបង្ហាញពីអារម្មណ៍ ឈឺចាប់ខ្លាំងនៃជម្ងឺរបស់ខ្លួន ដូចជា៖

»ខ្ញុំឈឺក្បាលណាស់...
»ខ្ញុំឈឺ
»ខ្ញុំឈឺធ្ងន់ធ្ងរណាស់
»ខ្ញុំមានការឈឺចាប់ណាស់
»បាទ ខ្ញុំមានជម្ងឺ (គ្រុនក្តៅ) ដូចបុរសពីរនាក់នៃពួកអ្នក
»បង្ហាញពីការថប់អារម្មណ៍ និងក្តីបារម្ភ
»បង្ហាញថាមិនមានឱសថព្យាបាលវាទេ

~Allah នៅជាមួយខ្ញុំបំរើរបស់ទ្រង់ដែលមានជំងឺ

•ការបួងសួងសំរាប់អ្នកជម្ងឺ

Caption

~សូត្រសំរាប់អ្នកជម្ងឺ៖

" لا بَأسَ ؛ طَهُورٌ إنْ شَاءَ اللهُ "
"គ្មានបញ្ហាអ្វីទេ អ្នកនឹងស្អាតស្អំ(ដោយសារជម្ងឺនេះ) ប្រសិនបើអល់ឡោះប្រាថ្នា" (រាយការណ៍ដោយ អាល់ពូខរី)
(Riyad as-Salihin 907)

~Jibril បានសូត្រសំរាប់រ៉ស៊ូលុលឡោះនៅពេលគាត់មានជម្ងឺថា ៖

"بِسْمِ اللهِ أرْقِيكَ ، مِنْ كُلِّ شَيْءٍ يُؤْذِيكَ ، مِنْ شَرِّ كُلِّ نَفْسٍ أَوْ عَيْنِ حَاسِدٍ ، اللهُ يَشْفِيكَ ، بِسمِ اللهِ أُرقِيكَ"

"នឹងនាមអល់ឡោះ ខ្ញុំសូត្រព្យាបាលអ្នក អំពីរាល់ប្រការអាក្រក់ដែលធ្វើប៉ះពាល់ ដល់អ្នក និងអំពីប្រការអាក្រក់នៃបុគ្គលទាំងឡាយ ប្រការអាក្រក់ដែលបង្ក ដោយភ្នែករបស់អ្នកឈ្នានីស។ អល់ឡោះគឺជាអ្នកព្យាបាលអ្នកហើយនឹងនាម អល់ឡោះខ្ញុំសូត្រព្យាបាលអ្នក" (រាយការណ៍ដោយមូស្លីម)

(Riyad as-Salihin 908)

~សូត្រដោយយកចង្អុលដៃដាក់លើដី និងលើកឡើងហើយសូត្រថា៖

" بِسمِ الله ، تُرْبَةُ أرْضِنَا ، بِرِيقَةِ بَعْضِنا ، يُشْفَى بِهِ سَقِيمُنا ، بإذْنِ رَبِّنَا "

(Riyad as-Salihin 901)

~សូត្រដោយយកដៃស្តាំរបស់យើងប៉ះអ្នកជម្ងឺនឹងសូត្រថា៖

« اللَّهُمَّ ربَّ النَّاسِ ، أَذْهِب الْبَأسَ ، واشْفِ ، أَنْتَ الشَّافي لا شِفَاءَ إلاَّ شِفَاؤُكَ ، شِفاءً لا يُغَادِرُ سقَماً » متفقٌ عليه .

»ឬ

Caption

" اللَّهُمَّ رَبَّ النَّاسِ ، مُذْهِبَ البَأسِ ، اشْفِ أنْتَ الشَّافِي ، لا شَافِيَ إلا أنْتَ ، شِفَاءً لا يُغَادِرُ سَقَماً "

"ឱអល់ឡោះជាម្ចាស់នៃមនុស្សលោក! ជាអ្នកមានលទ្ធភាពបំបាត់នូវជម្ងឺនេះ សូមទ្រង់ព្យាបាលគាត់អោយជាសះស្បើយ ទ្រង់គឺជាអ្នកមានលទ្ធភាពធ្វើអោយ ជា គ្មានអ្នកណាមានលទ្ធភាពក្រៅពីទ្រង់ឡើយ "

(រាយការណ៍ដោយអាល់ពូខរី)

(Riyad as-Salihin 902, 903)

~សូត្រសំរាប់អ្នកជម្ងឺ៖

" اللَّهُمَّ اشْفِ سَعْداً ، اللَّهُمَّ اشْفِ سَعْداً ، اللَّهُمَّ اشْفِ سَعْداً "

"ឱអល់ឡោះ! សូមអោយសាអាត់បានជាសះស្បើយផង! សូមអោយសាអាត់បានជាសះស្បើយផង!ៗ" (រាយការណ៍ដោយមូស្លីម)

(Riyad as-Salihin 904)

~អ្នកជម្ងឺត្រូវសូត្រដោយដាក់ទៅកន្លែងដែលឈឺ ឬមានជម្ងឺ និងសូត្រថា៖

1.សូត្រ بسم الله ចំនួន 3 ដង

2.បន្ទាប់មកសូត្រចំនួន 7 ដងថា៖

" أَعُوذُ بِعِزَّةِ الله وَقُدْرَتِهِ مِنْ شَرِّ مَا أَجِدُ وَأُحَاذِرُ"

"ខ្ញុំសុំពីភាពឧត្តុង្គឧត្តមរបស់អល់ឡោះ និងអានុភាពរបស់ទ្រង់ អោយបញ្ចៀសខ្ញុំ អំពីប្រការអាក្រក់ដែលខ្ញុំមាន និងពីអ្វីដែលខ្ញុំខ្លាច" (រាយការណ៍ដោយមូស្លីម)

(Riyad as-Salihin 905)

~សូត្រសំរាប់អ្នកជម្ងឺដែលមិនទាន់ស្លាប់៖

" أَسْأَلُ اللهَ العَظيمَ ، رَبَّ العَرْشِ العَظيمِ ، أنْ يَشْفِيَكَ "

"ខ្ញុំសុំពីអល់ឡោះដ៏មហិមា ម្ចាស់នៃបល្ល័ង្គដ៏មហិមា សូមទ្រង់ព្យាបាលអ្នកអោយ បានជាសះស្បើយ"

(Riyad as-Salihin 906)

•សីលធម៌នៃ Iyaadah

»យោងទៅតាមអ្នកប្រាជ្ញអីស្លាម Imaam Ghazaali and Allamah Teebi បានរៀបរាប់អំពីសីលធម៌នៅក្នុង
Iyaadah មានដូចជា៖

1.យកទឹក Wudu’

2.អង្គុយនៅផ្នែកខាងស្តាំគ្រែ និងក្បាលអ្នកជម្ងឺ

3.ដាក់ដៃលើដៃ និងថ្ងាសអ្នកជំងឺ

4.សួរអ្នកជំងឺអំពីបញ្ហាសុខភាពរបស់ពួកគេ

5.អង្គុយតែមួយរយះពេល (រយះពេលនៃបំបៅដោះកូនសត្វអូដ្ឋ) ។ ការនៅជាមួយអ្នកជម្ងឺយូរនាំឲ្យមានបញ្ហាដល់អ្នកជំងឺផងនិងខ្លួនរបស់យើងផង

6.បួងសួងឲ្យអ្នកជំងឺ

7.ស្នើរឲ្យអ្នកជំងឺបួងសួងសំរាប់យើងវិញ

8.ប្រើពាក្យសម្តីល្អ និងធ្វើឲ្យពួកគេរីករាយមិនបារម្ភ ដូចជា និយាយថា៖ កុំបារម្ភ! អ្នកនឹងមានសុខភាពល្អឆាប់ៗនេះ! អល់ឡោះជាម្ចាស់នឹងផ្តល់សុខភាពល្អដល់អ្នក ។

9.បំពេញបំណងប្រាថ្នាអ្នកជំងឺ ដូចការចង់បរិភោគអាហារ ឬកន្លែងដេកព្យាបាលដែលសមរម្យជាដើម

10.កុំជំរុញអ្នកជំងឺបរិភោគអ្វីមួយ

11.មិនគួរបង្កើតបរិយាកាសអ៊ូអែចំពោះមុខអ្នកជំងឺ

12.បន្ទាបភ្នែកមិនត្រូវសំឡឹងមើលកន្លែងផ្ទាល់ខ្លួនរបស់ អ្នកជំងឺនោះទេ (private areas)

13.សូត្របន្ទឹខ្លាំងៗនៃ Talqeen of Kalimah Tayyibah

សំរាប់អ្នកជំងឺដែលជិតស្លាប់៖

لَا إِلٰهَ إِلَّاٱللَّٰهُ مُحَمَّدٌ رَسُولُ ٱللَّٰهِ

14.អាចសួរគ្រួសារអ្នកជំងឺ ឬអ្នកព្យាបាលអំពីស្ថានភាពអ្នកជំងឺបើយើងមិនអាចទៅសួរសុខទុក្ខបាន

•សីលធម៌របស់អ្នកជំងឺ



Caption

»Imaam Ghazaali បានសរសេរនៅក្នុងសៀវភៅ Ihyaa-ul-Uloom ថាអ្នកជំងឺគួរតែអនុវត្តដូចជា៖

1.មានអំណត់ Sabr

2.មិនគួរត្អូញត្អែរច្រើន

3.បួងសួងឲ្យបានច្រើន

4.ផឹកថ្នាំ ព្រោះវាជាស៊ុណ្ណះ (គ្រប់ជំងឺសុទ្ធតែមានថ្នាំព្យាបាល)

5.Tawakkul ផ្តល់ទំនុកចំពោះអល់ឡោះជាម្ចាស់តែមួយគត់

6.ត្រូវមានក្តីសង្ឃឹម

7.មិនត្រូវស្តីបន្ទោ និងដាក់បណ្តាសារទៅលើជំងឺនោះទេ ព្រោះវាអាចលុបអំពើបាបរបស់យើងផ្ទាល់

8.បួងសួងសុំឲ្យមានសុខភាពល្អ a'fiyat (សុវត្ថិភាព និងការការពារពីអល់ឡោះ)

9.មិនត្រូវប្រាថ្នាចង់ស្លាប់នោះទេ

10.ត្រូវបំពេញការសម្បថ (បន្ទាប់ពីបានជាសះស្បើយពីជម្ងឺ) បើអ្នកជំងឺបានធ្វើសម្បថអ្វីមួយនៅពេលមានជំងឺ

11.បួងសួងសុំខមាលទោសពីអល់ឡោះជាម្ចាស់ ជាពិសេសក្នុងករណីអ្នកជំងឺគ្មានសង្ឃឹម នឹងបន្តទៅមុខទៀតបាន

12.មាន Wasiyyat (the will) ល្អ ។វាជាការចង់បានសំរាប់អ្នកជំងឺគួរតែធ្វើការបរិច្ចាគ ធ្វើគួរបានសំឡេះសត្វ បង់ Zakat និងប្រការល្អផ្សេងៗទៀតដើម្បីជាប្រយោជន៍នៅថ្ងៃបរលោក

13.រៀបចំខ្លួនសំរាប់ថ្ងៃបរលោក៖

»ជនដែលមានបំណងប្រាថ្នាចង់ជួបអល់ឡោះ! អល់ឡោះក៏ចូលចិត្តជួបគាត់ផងដែរ ។

»នៅពេលអ្នកជំងឺស្ថិតក្នុងដំណាក់កាលមិនអាចទៅមុខទៀត និងគ្មានសង្ឃឹម ហើយសេចក្តីស្លាប់កំពុងរង់ចាំចំពោះមុខ អ្នកជំងឺខ្លួនផ្ទាល់គួរតែរៀបចំដូចខាងក្រោម៖

I.សំអាតជាមួយ miswaak

II.មុជទឹក ghusal

Caption

III.ស្លៀកសំលៀកបំពាក់ស្អាត

IV.លាបទឹកអប់ (ដើម្បីម៉ាឡាអីកាត់នឹងមកដល់)

V.សឡាត 2 rak'at ដើម្បីសំអាតអំពើបាបកម្មទាំងឡាយ (មនុស្សមួយចំនួនចង់ឲ្យដង្ហើមចុងក្រោយរបស់ពួកគេក្រាប ស៊ូជូតចំពោះអល់ឡោះ)

VI.សូត្រជានិច្ចពាក្យ Kalimat ៖

لَا إِلٰهَ إِلَّا اللّٰهُ

•ការសន្ទនារបស់អល់ឡោះជាម្ចាស់អំពី Iyaadah និងគុណសម្បត្តិរបស់អ្នកជំងឺ

~Iyaadah អល់ឡោះបានបញ្ជាក់នៅក្នុង Hadith ថា៖

អំពីគាត់ رضي الله عنه ដែរថា  រ៉ស៊ូលុលឡោះបានមានប្រសាសន៍ថា : អល់ឡោះបានមានបន្ទូលថា : " ឱកូនចៅអាដាំ! យើងមានជម្ងឺ ប៉ុន្តែអ្នកមិនបាន មកសួរសុខទុក្ខយើងទេ!" គាត់បានឆ្លើយថា: ឱម្ចាស់របស់ខ្ញុំ! តើអោយខ្ញុំសួរ សុខទុកទ្រង់យ៉ាងដូចម្តេចបើទ្រង់ជាម្ចាស់នៃពិភពទាំងមូល?! ទ្រង់បានតបថា:"តើអ្នកមិនដឹងទេឬថាខ្ញុំរបស់យើងមានជម្ងឺប៉ុន្តែអ្នកមិនបានទៅសួរសុខទុក្ខគាត់? តើអ្នកមិនដឹងទេឬថា ប្រសិនបើអ្នកទៅសួរសុខទុក្ខគាត់ អ្នកនឹងជួបយើងនៅទីនោះ ?កូនចៅអាដាំ!យើងសុំអាហារពីអ្នកប៉ុន្តែអ្នកមិនបានផ្តល់អាហារដល់យើង ឡើយ!ឱគាត់បានឆ្លើយថា:ឱម្ចាស់របស់ខ្ញុំ! តើអោយខ្ញុំផ្តល់អាហារដល់ទ្រង់យ៉ាងដូចម្តេចបើទ្រង់ជាម្ចាស់នៃពិភពទាំងមូល?!    ទ្រង់បានតបថា: " តើអ្នកមិនដឹងទេឬថា ខ្ញុំរបស់យើងបានសុំអាហារពីអ្ន ប៉ុន្តែអ្នកមិនបានផ្តល់អោយគាត់? តើ អ្នកមិនដឹងទេឬថា ប្រសិនបើអ្នកផ្តល់អាហារអោយគាត់អ្នកនឹងទទួលបានផល បុណ្យនោះពីយើង?ឱកូនចៅអាដាំ!យើងសុំទឹកពីអ្នកប៉ុន្តែអ្នកមិនបានផ្តល់ទឹកដល់ យើងឡើយ!ឱគាត់បានឆ្លើយថា:ឱម្ចាស់របស់ខ្ញុំ!តើអោយខ្ញុំផ្តល់ទឹកដល់ទ្រង់យ៉ាង ដូចម្តេចបើទ្រង់ជាម្ចាស់នៃពិភពទាំងមូល?! ទ្រង់បានតបថា : " តើអ្នកមិនដឹងទេ ឬថាខ្ញុំរបស់យើងបានសុំទឹកពីអ្នកប៉ុន្តែអ្នកមិនបានផ្តល់អោយគាត់?តើអ្នកមិនដឹង ទេឬថា ប្រសិនបើអ្នកផ្តល់ទឹកអោយគាត់ អ្នកនឹងទទួលបានផលបុណ្យនោះពី យើង"(រាយការណ៍ដោយមូស្លីម)

Caption

(Riyad as-Salihin 896)

»អ្នកជំងឺបានចូលឋានសួគ៌ដោយសូត្រឃ្លាខាងក្រោម៖

អាពូសាអ៊ីទ និង អាពូហ៊ូរ៉យរ៉ោះ رضي الله عنهما បានធ្វើសាក្សីថា: ពិតប្រាកដ រ៉ស៊ូលុលឡោះ ﷺមានប្រសាសន៍ថា : "បុគ្គលណាពោលថា :

لا إِلَهَ إِلا اللهُ وَاللهُ أَكْبَرُ

(គ្មានទេម្ចាស់ដែលត្រូវគេគោរពសក្ការៈដ៏ត្រឹមត្រូវ មានតែអល់ឡោះ អល់ឡោះគឺជាម្ចាស់ធំធេងបំផុត) ម្ចាស់របស់គាត់បាន ឆ្លើយ តប បញ្ជាក់ពីភាពត្រឹមត្រូវរបស់គាត់ថាៈ


لا إله إلا أنَا وأنَا أَكْبَرُ

(គ្មានទេ ម្ចាស់ដែលត្រូវគេគោរពសក្ការៈ ដ៏ត្រឹមត្រូវមានតែយើង ហើយយើងគឺជាម្ចាស់ ដ៏ធំធេងបំផុត)។ នៅពេលគាត់ ពោលថាៈ

لا إلهَ إلا اللهُ وَحدَهُ لا شَرِيكَ لَهُ

( គ្មានទេម្ចាស់ដែលត្រូវគេ គោរពសក្ការៈដ៏ត្រឹមត្រូវ មានតែអល់ឡោះម្នាក់គត់ គ្មានទេស៊ីរិកទៅចំពោះទ្រង់) ទ្រង់បានតបទៅចំពោះគាត់វិញថាៈ

لا إلهَ إلا أنَا وَحْدِي لا شَرِيكَ لِي

( គ្មានទេម្ចាស់ដែលត្រូវគេ គោរពសក្ការៈ ដ៏ត្រឹមត្រូវ មានតែយើងម្នាក់គត់ គ្មានទេស៊ីរិកមកចំពោះយើង)។ នៅពេលគាត់ ពោលថាៈ

لا إلهَ إلا اللهُ لَهُ المُلْكُ وَلَهُ الحَمْدُ

(គ្មានទេម្ចាស់ដែលត្រូវគេ គោរពសក្ការៈដ៏ត្រឹមត្រូវមានតែអល់ឡោះ  ទ្រង់គឺជាអ្នកមានកម្មសិទ្ធិគ្រប់គ្រង និងត្រូវគេកោតសរសើរ)។ ទ្រង់បានតបវិញថាៈ

لا إلهَ إلا أنَا لِيَ المُلْكُ وَلِيَ الحَمْدُ

( គ្មានទេម្ចាស់ដែលត្រូវគេ គោរពសក្ការៈ ដ៏ត្រឹមត្រូវ មានតែយើងម្នាក់គត់  យើងគឺជា
Caption
គឺជាអ្នកមានកម្មសិទ្ធិ គ្រប់គ្រង និងត្រូវគេកោតសរសើរ)។ នៅពេលគាត់សូត្រថាៈ

لا إلهَ إلا اللهُ وَلَا حَوْلَ وَلَا قُوَّةَ إلا بِاللهِ

(គ្មានទេម្ចាស់ដែល ត្រូវគេ គោរពសក្ការៈ ដ៏ត្រឹមត្រូវ មានតែអល់ឡោះ ហើយគ្មានទេអានុភាព និងឥទ្ធិពល ក្រៅអំពីទ្រង់) ទ្រង់បានតបថាៈ

لا إلهَ إلا أنَا وَلَا حَوْلَ وَلَا قُوَّةَ إلا بِي

(គ្មានទេម្ចាស់ដែលត្រូវគេគោរពសក្ការៈដ៏ត្រឹមត្រូវមានតែយើង គ្មានទេអានុភាព និងឥទ្ធិពលក្រៅអំពីយើង)។ លោកបានមានប្រសាសន៍ថាៈ" បុគ្គលណាសូត្រវា នៅពេលឈឺ ហើយក្រោយមកគាត់បានស្លាប់ ភ្លើងនរកនឹងមិនឆេះគាត់ឡើយ" (រាយការណ៍ដោយអាត់តៀសមីត្ស៊ី ហើយគាត់និយាយ ថាៈ ហាទីសនេះល្អ)

(Riyad as-Salihin 909)

•Iyaadah អ្នកជម្ងឺ Corona Virus

~នៅពេលជម្ងឺគ្រុនក្តៅបានឆ្លងពាសពេញទីក្រុង Medina នាសម័យរ៉ស៊ូលុលឡោះគាត់បានចូលពីផ្ទះមួយទៅផ្ទះមួយ
និងបួងសួងសុខភាពល្អសំរាប់ពួកគេ ។

~Iyaadah សំរាប់អ្នកជំងឺ COVID-19 កំរិតស្រាល
ត្រូវមានការ ប្រុងប្រយ័ត្នខ្ពស់៖

1.លាងដៃនឹងទឹកស្អាត សាប៊ូ ឬអាល់កុល

2.ពាក់ម៉ាស់

3.នៅគំលាតពីអ្នកជំងឺ (1,5 ម៉ែត្រ ទៅ 2 ម៉ែត្រ)

4.មិនត្រូវប៉ះពាល់សំភារះក្នុងបន្ទប់នោះ

5.បួងសួងសំរាប់អ្នកជំងឺ៖

Caption

" اللَّهُمَّ إنِّي أَعُوذُ بِكَ مِنَ البَرَصِ ، والجُنُونِ ، والجُذَامِ ، وَسَيِّيءِ الأَسْقَامِ "
(ឱអល់ឡោះ ! ខ្ញុំពិតជាសុំពីទ្រង់មេត្តាបញ្ចៀសខ្ញុំពីជម្ងឺភឿក ជម្ងឺឆ្កួត ជម្ងឺឃ្លង់ និងជំងឺអាក្រក់ទាំងឡាយ)" (រាយការណ៍ដោយអាពូដាវូទ ដោយមានបង្អែក ត្រឹមត្រូវ)
(Riyad as-Salihin 1484)

»បន្ទាប់ពីត្រឡប់មកផ្ទះវិញ៖

1.សំលៀកបំពាក់ជ្រលក់នឹងទឹកក្តៅ ឬបោកសំអាត

2.នៅគំលាតពីអ្នកដទៃមួយរយះពេល

3.មិនគួរនៅទីប្រជុំជន ឬត្រឡប់មកផ្ទះវិញតែម្តង

4.ផឹកថ្នាំដែលពាក់ព័ន្ធនឹងជំងឺរលាកទងសួត និងក្ដៅខ្លួន (Paracetamol Bromhexine ជាដើម...)

5.បើសង្ស័យថាខ្លួនមានជំងឺត្រូវធ្វើតេស្ដ និងពិគ្រោះជាមួយវេជ្ជបណ្ឌិត

•ផ្សេងៗ

~អ្នកជំងឺដែលជិតស្លាប់ចូរយើងបង្រៀនពួកគេនៃឃ្លាដែល នាំឲ្យមានផលប្រយោជន៍សំរាប់ជីវិតរបស់ពួកគេបន្ទាប់ពីស្លាប់រួច (لا إله إلا الله) ។

អំពីអាពូសាអ៊ីទ អាល់ឃុទរី رضي الله عنه ថា រ៉ស៊ូលុលឡោះ ﷺ មានប្រសាសន៍ថា : "ចូរពួកអ្នកបង្រៀនអ្នកដែលជិតស្លាប់នៃពួកអ្នកអោយសូត្រថា لا إله إلا الله (គ្មានទេម្ចាស់ដែលត្រូវគេគោរពសក្ការៈដ៏ត្រឹមត្រូវមានតែអល់ឡោះ)"
(រាយការណ៍ដោយមូស្លីម)
(Riyad as-Salihin 918)
Caption